(Sin in Islam, Part I)

وعن النَّوَّاسِ بنِ سمعانَ رضي اللهَّ عنه قال : سأَلْتُ رسُولَ اللهَّ صَلّى اللهُ عَلَيْهِ وسَلَّم عنِ البِرِّ والإِثمِ فقالَ : « البِرُّ حُسنُ الخُلُقِ ، والإِثمُ : ما حاكَ في نَفْسِكَ ، وكَرِهْتَ أَنْ يَطَّلعَ عَلَيْهِ النَّاسُ » رواهُ مسلم .

អំពី អាន់ណាវ៉ាស ពិន សាំអាន رضي الله عنه ថា: ខ្ញុំបានសួររ៉សូលុលឡោះ ﷺ អំពី ទង្វើបុណ្យ និងទង្វើបាប។ លោកបានឆ្លើយថា: ទង្វើបុណ្យគឺ សីលធម៌ល្អ ចំណែក ទង្វើបាបគឺ អ្វីដែលធ្វើអោយចិត្តរបស់អ្នកអល់អែក ហើយមិនចង់អោយមនុស្ស ដទៃដឹង"។

(រាយការណ៍ដោយមូស្លីម)

(Riyad as-Salihin 624)

كَلَّا ۖ بَلْ ۜ رَانَ عَلَىٰ قُلُوبِهِمْ مَا كَانُوا يَكْسِبُونَ
سورة المطففين:14

ទេ! ផ្ទុយទៅវិញ អ្វី(បាបកម្ម)ដែលពួកគេប្រព្រឹត្តនោះ បានគ្របដណ្តប់លើចិត្តរបស់ពួកគេ។

Caption

إِذْ تَلَقَّوْنَهُ بِأَلْسِنَتِكُمْ وَتَقُولُونَ بِأَفْوَاهِكُمْ مَا لَيْسَ لَكُمْ بِهِ عِلْمٌ وَتَحْسَبُونَهُ هَيِّنًا وَهُوَ عِنْدَ اللَّهِ عَظِيمٌ
سورة النور:15

នៅពេលដែលពួកអ្នកបាននិយាយផ្សព្វផ្សាយវា(ការមួល បង្កាច់)តៗគ្នាដោយអណ្តាតរបស់ពួកអ្នក ហើយពួកអ្នកនិយាយ ចេញពីមាត់របស់ពួកអ្នកនូវអ្វីដែលពួកអ្នកមិនបានដឹងច្បាស់ពីវា។ ហើយពួកអ្នកគិតថា វាជារឿងតូចតាច ខណ:ដែលវាគឺជារឿងធំ បំផុតចំពោះអល់ឡោះ។

قُلْ إِنْ كُنْتُمْ تُحِبُّونَ اللَّهَ فَاتَّبِعُونِي يُحْبِبْكُمُ اللَّهُ وَيَغْفِرْ لَكُمْ ذُنُوبَكُمْ ۗ وَاللَّهُ غَفُورٌ رَحِيمٌ
سورة آل عمران:31

ចូរអ្នកពោលថា:ប្រសិនបើពួកអ្នកស្រឡាញ់អល់ឡោះ ចូរពួកអ្នកប្រតិបត្តិតាមខ្ញុំ អល់ឡោះពិតជាស្រឡាញ់ពួកអ្នក និង អភ័យទោសឱ្យពួកអ្នកនូវបាបកម្មទាំងឡាយរបស់ពួកអ្នក។ ហើយ អល់ឡោះមហាអភ័យទោស មហាអាណិតស្រឡាញ់។

1.តើ Sin គឺជាអ្វីនៅក្នុងទស្សនះរបស់អីស្លាម ?

2.តើអ្នកណានឹងត្រូវទទួលទណ្ឌកម្ម និងអភ័យអំពើបាបកម្មទាំងនេះ ?

3.តើអ្នកណានឹងត្រូវទទួលជំនួសបាបកម្មរបស់អ្នក mu’min ?

4.តើបាបកម្មធំដែលគេបានលើកឡើងក្នុងគម្ពីរជាអ្វី ? មូលហេតុអ្វី ?

5.តើគួរធ្វើអ្វីបន្ទាប់ពីបានប្រព្រឹត្តបាបកម្មរួច ?

6.តើអ្វីដែលអាចយកមកលាងទោសកំហុសបាបកម្មបាន ?

7.តើអ្នកណាជាអ្នកដាក់ទណ្ឌកម្មអំពើបាប ?

~Sin គឺជាអំពើបាប

~Sin الإثم គឺអ្វីដែលធ្វើអោយចិត្តរបស់អ្នកអល់អែក ហើយមិនចង់អោយមនុស្សដទៃដឹង រីឯទង្វើបុណ្យ គឺជាសីលធម៌ល្អ

(Riyad as-Salihin 624)

~Sin គឺខាកស្តោះ ឬស្លេសនៅក្នុង Masjid

(Sahih al-Bukhari 415)

~Sin គឺជនដែលមិនអើពើយកចិត្តទុកដាក់ទៅលើអ្វីដែលគាត់ត្រូវចិញ្ចឹម ។អំពើនេះគឺវាគ្រប់គ្រាន់ហើយនឹងទទួលបានបាបកម្ម

(សំរាប់បាបកម្ម الإِثْم)

(Sunan Abi Dawud 1692)

~Sin ត្រូវបានអីស្លាមពិពណ៌នាថាជាការប្រព្រឹត្តអ្វីមួយប្រឆាំងនឹងបទបញ្ជាព្រះ ការប្រព្រឹត្តល្មើសនឹងច្បាប់ និងបទដ្ឋានដែលបានកំណត់ដោយសាសនា

~Sin ត្រូវបានបែងចែកជា 2 គឺ បាបកម្មធំ (al-Kabirah) និងបាបកម្មតូច (al-Sagha'ir)
(al-Quran 53:31-32)

~Sin របស់អ្នក Mu’min នឹងត្រូវបានអល់ឡោះជាម្ចាស់អភ័យទោសឲ្យពួកគេ
(Sahih al-Bukhari 6069)

~Sin របស់អ្នក Mu’min ពួកគេមិនគួរប្រាប់ទៅអ្នកដ៏ទៃ ដោយសាអល់ឡោះជាម្ចាស់នឹងអភ័យទោសនាថ្ងៃបរលោក
(Sahih al-Bukhari 6070)

~Sin ធំៗនៃប្រជាជន Ummah នេះត្រូវបានរ៉ស៊ូលុលឡោះជាអ្នកជួយសុំខមាលទោសសំរាប់ពួកគេ
Caption
(សំរាប់បាបកម្មធំ)
(Sunan Abi Dawud 4739)

~Sin ជនដែលល្អបំផុតក្នុងការប្រព្រឹត្តវា គឺជនដែលធ្វើវារួចហើយធ្វើការ tawbah
(សំរាប់បាបកម្ម خطّاء)
(Sunan Ibn Majah 4251)

~Sin ចំនុចខ្មៅ ឬ Ran នឹងលេចឡើងនៅក្នុងចិត្តរបស់យើងនៅពេលណាយើងបានប្រព្រឹត្ត Sin
(សំរាប់បាបកម្ម ذَنب)
(al-Quran 83:14)
(Sunan Ibn Majah 4244)

~Sin កើនឡើង ចំនុចខ្មៅ ឬ Ran នឹងកើនឡើងផងដែរ

(Sunan Ibn Majah 4244)

~Sin السَّيِّئَاتِ នឹងត្រូវលុបចេញដោយទង្វើល្អ

(Riyad as-Salihin 434)

~Sin របស់ជនណាម្នាក់ដូចជាបាបកម្មរបស់ ឪពុក ឬបងប្អូនរបស់ពួកគេ គឺវាមិនអាចធ្វើឲ្យអ្នកណាម្នាក់នៅក្នុងគ្រួសារ នោះទទួលទណ្ឌកម្មជំនួសបាននោះទេ

(សំរាប់បាបកម្ម ឬបទឧក្រិដ្ឋ جِنَايَةٌ)

(Sunan an-Nasa'i 4126)

~Sin ការចង្អុលបង្ហាញផ្លូវអាក្រក់របស់ជនម្នាក់ដល់គេ គាត់នឹងត្រូវ ទទួលបាបកម្មដូចបាបកម្មរបស់អ្នកដែលអនុវត្តិតាមគាត់ ដោយមិនកាត់បន្ថយ បាបកម្មរបស់អ្នកអនុវត្តិតាមគាត់បន្តិចឡើយ ។

(សំរាប់បាបកម្ម الإِثْم)

Caption

(Riyad as-Salihin 174)

~Sin ការបិទបាំងវាសំរាប់ជនមូស្លីម គឺអល់ឡោះជាម្ចាស់នឹងបិទបាំងបាបកម្មរបស់ពួកគេវិញនៅលើលោកិយនេះ និងថ្ងៃបរលោក

(Sunan Ibn Majah 2544)

~Sin មិនអាចកើតឡើងចំពោះ Muhrim ដែលសំលាប់សត្វ 5 ប្រភេទនេះ៖ កណ្តុរ ខ្យាដំរី ខ្លែងស្រាក ឆ្កែឆ្កួត ក្អែក

(សំរាប់បាបកម្ម جناح)

(Sahih al-Bukhari 1826)

~Sin អ្នក Muttaqeen ឬអ្នក Waraaq ត្រូវបញ្ឈប់ធ្វើអ្វី មួយដែលវាមិនមានបញ្ហា ដោយសារខ្លាចវានាំឲ្យធ្លាក់ចូលទៅក្នុងអ្វីមួយដែលនាំឲ្យមានបាបកម្ម

(Sunan Ibn Majah 4215)

~Sin របស់កូនចៅ Adam ធ្វើឲ្យ The Black Stone

الحَجَرُ الأَسوَدُ ខ្មៅ (ថ្មនេះត្រូវបានបញ្ចុះមកពីឋានសួគ៌ដែល មានពណ៌សជាងទឹកដោះគោទៅទៀត)

(សំរាប់បាបកម្ម خطايا)

(Jami` at-Tirmidhi 877)

~ទង្វើល្អបំបាត់ចោលនូវទង្វើអាក្រក់ (السَّيِّئَاتِ)

(Riyad as-Salihin 434)

~ចិត្តបរិសុទ្ធ គឺជាចិត្តដែលសប្បុរស ស្អាតស្អំ គឺគ្មានអំពើបាប إِثْمَ អយុត្តិធម៌ គំគួនច្រណែននៅក្នុងនោះទេ

Caption

(Sunan Ibn Majah 4216)

~រ៉ស៊ូលុលឡោះបានសរសេរសំបុត្រទៅ Caesar ថា៖ បើសិនអ្នកបដិសេធអ៊ីស្លាមអ្នកនឹងទទួលខុសត្រូវចំពោះបាបកម្មរបស់ប្រជាជនរបស់អ្នក

(សំរាប់បាបកម្ម الإِثْمِ)

(Sahih al-Bukhari 2936)

~រ៉ស៊ូលុលឡោះជាអ្នកជួយសុំខមាលទោសនូវអ្នកប្រព្រឹត្តអំពើបាបធំៗនៃប្រជាជនរបស់គាត់

(សំរាប់បាបកម្មធំ)

(Sunan Abi Dawud 4739)

~ខ្ញុំបំរើអល់ឡោះជាម្ចាស់មិនឡើងដល់កំរិតឋានៈអ្នក Muttaqeen បាននោះទេរហូតដល់ពួកគេបញ្ឈប់ធ្វើអ្វី មួយដែលវាមិនមានបញ្ហានោះទេ ដោយសារខ្លាចវានាំឲ្យធ្លាក់ចូលទៅក្នុងអ្វីមួយដែលនាំឲ្យមានបាបកម្ម
(Sunan Ibn Majah 4215)

~ការហាមឃាត់គេមិនអោយធ្វើទង្វើអាក្រក់ Munkar ជាការបរិច្ចាគទានមួយ។ ការរួមរ័ក្សជាមួយភរិយារក៏ជាការបរិច្ចាគ
(Riyad as-Salihin 120)

~ឱរ៉សូលុលឡោះ!តើបុគ្គលណាម្នាក់ក្នុងចំណោមពួកយើង គេបំពេញចំណង់ខាងតណ្ហារបស់ខ្លួន ហើយបានផលបុណ្យទៀតឬ? លោកបានឆ្លើយថា : តើពួកអ្នកយល់យ៉ាងណាដែរ ប្រសិនបើគាត់បំពេញចំណង់ តណ្ហាក្នុងផ្លូវ ដែលគេហាមឃាត់ គាត់នឹងមានបាបកម្មមែនទេ?ដូច្នេះ បើគាត់ ធ្វើតាមផ្លូវដែលស្របច្បាប់គាត់នឹងទទួលបានផលបុណ្យ។
(Riyad as-Salihin 120)

Caption
~Mujahirin គឺជាប្រភេទមនុស្សដែលត្រូវបានអល់ឡោះជាម្ចាស់បិទបាំង ឬដាក់វនាំងបាបកម្មរបស់ពួកគេ តែក្រោយមកពួកគេបានដកចេញនូវវនាំងរបស់អល់ឡោះ (ការបិទបាំងនោះ) អំពីខ្លួនរបស់ពួកគេ
(Sahih al-Bukhari 6069)

»70 បាបកម្មធំៗដែលបានលើកឡើងនៅក្នុងគម្ពីរ Quran & Sunnah ៖

1.ការធ្វើ Shirk

2.ការសម្លាប់មនុស្ស

3.អំពើរខាប ឬសណ្ដំចិត្តដោយមន្តអាគម (Sorcery) និងមន្តអាគម ឬមន្តវិជ្ជា (Magic)

4.មិនប្រតិបត្តិ Salat

5.មិនបង់ Zakat

6.ការស្រាយបួសនៃខែ Ramadan ដោយគ្មានហេតុផលត្រឹមត្រូវ

7.មិនទៅធ្វើបុណ្យ Hajj នៅពេលមានលទ្ធភាព

8.មិនគោរពប្រតិបត្តិចំពោះឪពុកម្តាយ

9.ការកាត់ផ្តាច់ចំណងសាច់ញាតិ

10.អំពើផិតក្បត់

11.ការរួមភេទតាមរន្ធគូថ

12.ស៊ីប្រាក់ការ

13.ស៊ីទ្រព្យសម្បត្តិក្មេងកំព្រាដោយខុសច្បាប់

14.ការភូតភរអំពីរ៉ស៊ូលុលទ្បោះ ﷺ

15.ការរត់ចេញពីសមរភូមិ

16.អ្នកប្រើអំណាចជិះជាន់ (Oppressor) មេដឹកនាំផ្តាច់ការ (Tyrant) មេដឹកនាំដែលដឹកនាំអ្នកដើរតាមពួកគេទៅរកផ្លូវខុស (the Leaders who mislead)

Caption

17.ភាពក្រអឺតក្រទម ព្រហើន (Arrogance) មោទនភាព ដោយមានអំនួត (Pride) តូច្ឆភាព (Conceit) ភាពឥតបានការ ឥតប្រយោជន៍ (Vanity) ការវាឬក ការឆ្មើងឆ្មៃ (Haughtiness)

18.សាក្សីដែលកុហក

19.ផឹកគ្រឿងស្រវឹង

20.ល្បែងស៊ីសង

21.ការចោទប្រកាន់ស្ត្រីស្អាតស្អំថាផិតក្បត់

22.វិតិកម្មធន គឺការយកមកប្រើជាប្រយោជន៍ផ្ទាល់ខ្លួននៃ គ្រឿងជំយភណ្ឌសង្គ្រោម គ្រឿងដែលគេបរិច្ចាគ ឬ Zakat

23.ការលួច

24.ចោរប្លន់តាមផ្លូវដែលធ្វើការគំរាមគំហែងតាមផ្លូវ

25.ការស្បថខុសពីការពិតដើម្បីទទួលបានអ្វីមួយ

26.ការយកទ្រព្យសម្បត្តិអ្នកដទៃដោយខុសច្បាប់

27.ការយកពន្ធដារ Maks

28.ស៊ីរបស់របរ Haram

29.ការធ្វើអត្តឃាតខ្លួនឯង

30.ការនិយាយកុហក បោកប្រាស់

31.ការកាត់ក្តីដោយមិនយុត្តិធម៌ (Dishonest Judge)

32.ការស្រូកប៉ាន់

33.ការធ្វើត្រាប់តាមដែលផ្ទុយអំពីភេទរបស់ខ្លួន ដូចជាស្ត្រីដែលធ្វើតាមបុរស និងបុរសធ្វើតាមស្ត្រី

34.របរលក់ស្រី និងជនដែលអនុញ្ញាតិឲ្យប្រពន្ធទៅរួមភេទ

Caption

35.ការរៀបការតែម្នាក់ឯងដើម្បីបានត្រឡប់ទៅរកប្តីមុនវិញ

36.ការមិនសំអាតខ្លួនបន្ទាប់ពីបាននោមរួច

37.ការធ្វើអ្វីមួយដើម្បីចង់បង្ហាញឲ្យគេឃើញ

38.ការសិក្សាចំណេះវិជ្ជាដើម្បីបុព្វហេតុក្នុងលោកិយ និង រៀនរួចហើយបានលាក់បាំងអំពីវា

39.ការធ្វើឲ្យអស់ជំនឿទុកចិត្ត (Breach of Faith)

40.ការរំលឹកអំពីអ្នកទទួលយកការបរិច្ចាគ ឬសប្បុរសធម៌របស់ខ្លួនទៅចំពោះគេ

41.អជំនឿទៅលើជោគវាសនា កម្មផល (Qadr)

42.ការលួចស្តាប់ការសន្ទនាសម្ងាត់របស់អ្នកដទៃ

43.ការនិយាយញុះញង់ឲ្យកើតជាសត្រូវរវាងគ្នានឹងគ្នា

44.ការដាក់បណ្តាសាអ្នកដទៃ

45.ការមិនគោរពតាមកិច្ចសន្យា ឬកិច្ចព្រមព្រៀង

46.ការជឿទៅលើគ្រូទាយ និងហោរា

47.ការប្រឆាំងរបស់ប្រពន្ធទៅលើប្តី

48.ការគូររូបភាព សូនរូប

49.ការយំរំលែកទុក្ខសាកសពខ្លាំងៗ ឬនៅពេលជួបប្រទះនឹងគ្រោះផ្សេងៗ

50.ការបំពានទៅលើអ្នកដទៃ

51.ការដាក់បន្ទុកហួសហេតុ និងក្រអឺតក្រទមទៅលើអ្នកដទៃ

52.ការធ្វើឲ្យអ្នកជិតខាងឈឺចាប់

53.ការជេរប្រមាថ និងធ្វើឲ្យជនមូស្លីមឈឺចាប់

54.ការធ្វើទុក្ខទោសទៅលើខ្ញុំបំរើរបស់អល់ឡោះជាម្ចាស់

55.ការដើរបង្អួសជាយសំលៀកបំពាក់ដោយក្រអឺតក្រទម

Caption

56.បុរសដែលស្លៀកសំលៀកបំពាក់អំពីសូត្រ និងមាស

57.ទាសករដែលរត់គេច

58.ការសំឡេះសត្វហៅព្រះនាមផ្សេងអំពីអល់ឡោះជាម្ចាស់

59.ការទទួលស្គាល់ ឬហៅអ្នកដទៃថាជាឪពុករបស់ខ្លួន

60.ការឈ្លោះគ្នា និងការរករឿងបង្កជម្លោះ

61.ការទប់ ឬដកទឹកហួសប្រមាណពីអ្នកដទៃ

62.ការបន្លំរង្វាស់ ថ្លឹង វាស់ និងទំនិញផ្សេងៗ

63.ការគ្រេកគ្រអាលអំពីអ្វីដែលអល់ឡោះជាម្ចាស់បានរៀបចំសំរាប់ពួកគេ

64.ការអស់សង្ឃឹមនូវការប្រោសប្រណីរបស់អល់ឡោះជាម្ចាស់ និងការបាត់បង់សេចក្តីសង្ឃឹម

65.ការបោះបង់សឡាតជើរម៉ាអះ (the congregationalq prayer) ទៅជាសឡាតម្នាក់ឯងដោយគ្មានហេតុផលស្របច្បាប់

66.ការមិនសឡាត Ṣalāt al-Jumuʿah នៅថ្ងៃសុក្រនិងសឡាតជើរម៉ាអះជាដរាបដោយគ្មានហេតុផលត្រឹមត្រូវ

67.ការមិនផ្តល់ ឬបែងចែកកេរ្តិ៍ទៅអ្នកទទួលមរតក

68.ការបោកបញ្ឆោត និងគ្រោងការណ៍អាក្រក់

69.ការឃ្លាំមើលទៅលើមូស្លីម និងបង្ហាញប្រាប់អ្នកដទៃអំពី ចំនុចខ្សោយរបស់មូស្លីម

70.ការបង្ខូចបង្អាប់ Sahabat របស់រ៉ស៊ូលុលឡោះ

~រ៉ស៊ូលុលឡោះជាញឹកញាប់សុំជ្រោកកោនអំពីអល់ឡោះជាម្ចាស់អំពី Sin الاءثم និងបំណុល

Caption

" اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنَ الْكَسَلِ وَالْهَرَمِ وَالْمَغْرَمِ وَالْمَأْثَمِ

" أَعُوذُ بِاللَّهِ مِنَ الْكُفْرِ وَالدَّيْنِ "

" اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنْ غَلَبَةِ الدَّيْنِ وَغَلَبَةِ الْعَدُوِّ وَشَمَاتَةِ الأَعْدَاءِ "

" اللَّهُمَّ إِنِّي أَعُوذُ بِكَ مِنَ الْهَمِّ وَالْحَزَنِ وَالْكَسَلِ وَالْبُخْلِ وَالْجُبْنِ وَضَلَعِ الدَّيْنِ وَغَلَبَةِ الرِّجَالِ "

(Sunan an-Nasa'i 5477, 5472, 5475, 5476)